

ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ

# ច្បាប់
# ស្តីពី
# ភតិសន្យាពិសេស

ប្រកាសឲ្យប្រើដោយព្រះរាជក្រមលេខ នស/រកម/០៧១៥/០០៩
ចុះថ្ងៃទី២៦ ខែកក្កដា ឆ្នាំ២០១៥



# ព្រះរាជក្រម

នស/រកម/០៧១៥/០០៧

## យើង

## ព្រះករុណាព្រះបាទសម្តេចព្រះបរមនាថ នរោត្តម សីហមុនី
## សមានភូមិជាតិសាសនា រក្ខតខត្តិយា ខេមរារដ្ឋរាស្ត្រ ពុទ្ធិន្ទ្រាធរាមហាក្សត្រ
## ខេមរាជនា សមូហោភាស កម្ពុជឯករាជរដ្ឋបូរណសន្តិ សុភមង្គលា សិរីវិបុលា
## ខេមរាស្រីពិរាស្ត្រ ព្រះចៅក្រុងកម្ពុជាធិបតី

- បានទ្រង់យល់រដ្ឋធម្មនុញ្ញនៃព្រះរាជាណាចក្រកម្ពុជា
- បានទ្រង់យល់ព្រះរាជក្រឹត្យលេខ នស/រកត/០៩១៣/៩០៣ ចុះថ្ងៃទី២៤ ខែកញ្ញា ឆ្នាំ២០១៣ ស្តីពីការតែងតាំងរាជរដ្ឋាភិបាលនៃព្រះរាជាណាចក្រកម្ពុជា
- បានទ្រង់យល់ព្រះរាជក្រមលេខ ០២/នស/៩៤ ចុះថ្ងៃទី២០ ខែកក្កដា ឆ្នាំ១៩៩៤ ដែលប្រកាសឲ្យប្រើច្បាប់ស្តីពីការរៀបចំ និងការប្រព្រឹត្តទៅនៃគណៈរដ្ឋមន្ត្រី
- បានទ្រង់យល់សេចក្តីក្រាបបង្គំទូលថ្វាយរបស់សម្តេចអគ្គមហាសេនាបតីតេជោ ហ៊ុន សែន នាយករដ្ឋមន្ត្រីនៃព្រះរាជាណាចក្រកម្ពុជា

## ប្រកាសឲ្យប្រើ

ច្បាប់ ស្តីពីភតិសន្យាពិសេស ដែលរដ្ឋសភាបានអនុម័តកាលពីថ្ងៃទី០៦ ខែកក្កដា ឆ្នាំ២០១៥ នាសម័យប្រជុំរដ្ឋសភាលើកទី៤ នីតិកាលទី៥ ហើយដែលព្រឹទ្ធសភាបានពិនិត្យចប់សព្វគ្រប់លើទម្រង់ និងគតិច្បាប់នេះទាំងស្រុងកាលពីថ្ងៃទី១៧ ខែកក្កដា ឆ្នាំ២០១៥ នាសម័យប្រជុំពេញអង្គលើកទី៧ នីតិកាលទី៣ ហើយដែលមានសេចក្តីទាំងស្រុងដូចតទៅ ៖



## ជំពូកទី ១
## បទប្បញ្ញត្តិទូទៅ

**មាត្រា ១.-**

ច្បាប់នេះមានគោលបំណងជានាការពារសិទ្ធិ និងផលប្រយោជន៍របស់ភតិបតី និងភតិកៈដែលត្រូវបានបង្កើតឡើងដោយភតិសន្យាពិសេស ដើម្បីស្ថិរភាពក្នុងជីវភាពរស់នៅសណ្តាប់ធ្នាប់ និងរបៀបរៀបរយសាធារណៈ ។

**មាត្រា ២.-**

ច្បាប់នេះមានគោលដៅបញ្ញត្តិ វិធានពិសេសសម្រាប់អនុវត្តចំពោះភតិសន្យាពិសេស ។

**មាត្រា ៣.-**

ច្បាប់នេះ មានវិសាលភាពអនុវត្តចំពោះភតិសន្យាពិសេសដែលមាន ៖

- ភតិបតីជាអ្នកដែលយកថ្លៃឈ្នួលក្នុងលក្ខណៈជាអាជីព
- ភតិកៈជាកម្មករ សិស្ស និស្សិតដែលជួលអចលនវត្ថុក្នុងគោលបំណងស្នាក់នៅ
- អចលនវត្ថុដែលជាកម្មវត្ថុនៃភតិសន្យា គឺជាបន្ទប់ជួលស្នាក់នៅ ។

បទប្បញ្ញត្តិនៃក្រមរដ្ឋប្បវេណីត្រូវយកមកអនុវត្ត លើកលែងតែមានកំណត់ផ្សេងក្នុងច្បាប់នេះ ។

**មាត្រា ៤.-**

វាក្យស័ព្ទបច្ចេកទេសប្រើក្នុងច្បាប់នេះ ៖

- **ភតិសន្យាពិសេស** សំដៅលើកិច្ចសន្យាមួយដែលភាគីម្ខាង ហៅថាភតិបតីឲ្យភាគីម្ខាងទៀតដែលជាកម្មករ សិស្ស និស្សិត ហៅថា ភតិកៈប្រើប្រាស់ក្នុងការស្នាក់នៅដោយយកថ្លៃ ។
- **កម្មករ ដែលរួមមានកម្មករក្នុងប្រព័ន្ធ និងកម្មករក្រៅប្រព័ន្ធ** សំដៅដល់អ្នកធ្វើការហត្ថកម្មយកកម្រៃក្រោមការដឹកនាំរបស់និយោជក ឬតំណាងនៃជននោះ និងដែលមានប្រាក់កំរៃគោលប្រចាំខែទាប ដែលកំរិតកំណត់ដោយអនុក្រឹត្យ ។
- **សិស្ស និស្សិត** សំដៅដល់អ្នករៀននៅតាមសាលាវិជ្ជាជីវៈ ឬមហាវិទ្យាល័យ ឬសកលវិទ្យាល័យ និងដែលមានការលំបាកខ្លាំងក្នុងការទ្រទ្រង់ជីវភាពដោយសារការបង់ប្រាក់ថ្លៃឈ្នួល ។



## ជំពូកទី ២
## អានុភាព

**មាត្រា ៥.-**

កតិសន្យាពិសេសត្រូវធ្វើជាលាយលក្ខណ៍អក្សរ និងមានសេចក្តីបញ្ជាក់របស់មេឃុំ ឬចៅសង្កាត់ ។

កតិបតីមានករណីយកិច្ចធ្វើកិច្ចការចាំបាច់ ដើម្បីទទួលបាននូវការបញ្ជាក់តាមកំណត់នៅក្នុងកថាខណ្ឌទី ១ ខាងលើនេះ ។

កិច្ចសន្យាដែលមិនបានបំពេញលក្ខខណ្ឌទម្រង់ដូចមានចែងក្នុងកថាខណ្ឌទី ១ ខាងលើនេះ កតិកៈមានសិទ្ធិជ្រើសរើសយកបញ្ញត្តិនៃច្បាប់នេះ ឬបញ្ញត្តិនៃក្រមរដ្ឋប្បវេណីមកអនុវត្ត ។

**មាត្រា ៦.-**

កតិសន្យាពិសេសមានអត្ថិភាពក្នុងអំឡុងពេលមិនតិចជាង ២ (ពីរ) ឆ្នាំ ។

កតិសន្យាពិសេសដែលមិនកំណត់អំឡុងពេល ឬកំណត់អំឡុងពេលតិចជាង ២ (ពីរ) ឆ្នាំ ត្រូវចាត់ទុកថាមានអត្ថិភាពអំឡុងពេល ២ (ពីរ) ឆ្នាំ ។

**មាត្រា ៧.-**

កតិបតីមានសិទ្ធិរំលាយកតិសន្យាពិសេសបានតែក្នុងករណីណាមួយដូចខាងក្រោម ៖

-កតិកៈមិនបង់ថ្លៃឈ្នួល ២ (ពីរ) ដង ជាបន្តបន្ទាប់ ដោយគ្មានមូលហេតុសមស្រប ។
-កតិកៈប្រើប្រាស់ និងអាស្រ័យផលលើវត្ថុជួលខុសពីគោលបំណងនៃការជួល ។
-កតិកៈដោយចេតនាធ្វើឲ្យប៉ះពាល់ដល់សណ្តាប់ធ្នាប់ច្រើនលើក និងបង្កឲ្យមានឥទ្ធិពលធ្ងន់ធ្ងរដល់ជីវភាពរស់នៅជាប្រក្រតីរបស់អ្នករស់នៅជុំវិញ ។
-បន្ទប់ជួលស្នាក់នៅ ត្រូវជួសជុលធំៗ ឬសាងសង់ជាថ្មីតាមបញ្ជារបស់អាជ្ញាធរមានសមត្ថកិច្ច ។

**មាត្រា ៨.-**

ក្នុងអំឡុងពេលដែលកតិសន្យាពិសេសមានអានុភាពអនុវត្ត កតិបតីមិនអាចតម្លើងថ្លៃឈ្នួលបានឡើយ ។

**មាត្រា ៩.-**

កតិកៈមានសិទ្ធិរំលាយកតិសន្យាពិសេសនៅពេលណាក៏បាន ។



## ជំពូកទី ៣
## អន្តរប្បញ្ញត្តិ

**មាត្រា ១០.-**

កតិសន្យាលើបន្ទប់ជួលសម្រាប់គោលបំណងនៃការស្នាក់នៅ ដែលបានបង្កើតមុនពេលច្បាប់នេះត្រូវបានអនុវត្ត ត្រូវបន្តអានុភាពអនុវត្តតាមខ្លឹមសារនៃកតិសន្យា រហូតដល់ផុតអំឡុងពេលដែលបានកំណត់ ។

## ជំពូកទី ៤
## អវសានប្បញ្ញត្តិ

**មាត្រា ១១.-**

ច្បាប់នេះ ត្រូវប្រកាសជាការប្រញាប់ ។

ធ្វើនៅព្រះបរមរាជវាំង ថ្ងៃទី ២៦ ខែ កក្កដា ឆ្នាំ២០១៥

**ព្រះហស្តលេខា និងព្រះរាជលញ្ឆករ**
**នរោត្តម សីហមុនី**

នសរ. ១៥០៧. ០២៤

បានយកសេចក្តីក្រាបបង្គំទូលថ្វាយព្រះមហាក្សត្រ
សូមឡាយព្រះហស្តលេខា
**នាយករដ្ឋមន្ត្រី**
**ហត្ថលេខា**
**សម្តេចអគ្គមហាសេនាបតីតេជោ ហ៊ុន សែន**

លេខៈ ៨១៩ ស.ណ
**សំណៅដែលមានតម្លៃជាការចែកផ្សាយ**
រាជធានីភ្នំពេញ ថ្ងៃទី ០៧ ខែ ៨ ឆ្នាំ២០១៥
**អគ្គលេខាធិការរាជរដ្ឋាភិបាល**



**សយ សុខា**